# សេចក្តីសង្ខេបស្តីអំពី
# ច្បាប់ឥស្លាម
# ទាក់ទងនឹងការបួស

مُختصرُ
في
# أحكام الصيام


جمع وترتيب
مضحي بن عبيد الشمري
عضو الدعوة والإرشاد بوزارة الشؤون الإسلامية
والأوقاف والدعوة والإرشاد

ចងក្រង និងរៀបរៀងដោយ
មូឌហ៊ី ភូន អ៊ូពែឌ អាស់ស្សារី
សមាជិកផ្នែកផ្សព្វផ្សាយនៃក្រសួងកិច្ចការឥស្លាម

ترجمه
موسى بن أحمد
ប្រែសម្រួលជាភាសាខ្មែរដោយ
មោសា អះម៉ាត់





1437هـ- 2016م

# مختصر
# في أحكام الصيام
# សេចក្តីសង្ខេបស្តីអំពី
# ច្បាប់ឥស្លាមទាក់ទងនឹងការបួស

جمع وترتيب


مضحي بن عبيد الشمري

عضو الدعوة والإرشاد بوزارة الشؤون الإسلامية

والأوقاف والدعوة والإرشاد

ចងក្រងនិងរៀបរៀងដោយ

មូឌហ៊ី កូន អ៊ូពែទ អាស់ស្យាំរី

សមាជិកផ្នែកផ្សព្វផ្សាយនៃក្រសួងកិច្ចការឥស្លាម

ترجمة/ موسى بن أحمد

ប្រែសម្រួលជាភាសាខ្មែរដោយ

មោសា អះម៉ាត់

بسم الله الرحمن الرحيم

الحمد لله رب العالمين، والصلاة والسلام على أشرف الأنبياء والمرسلين، أما بعد:

فهذا ملخص جمعته على طريقة السؤال والجواب، يتضمن مهمات مسائل الصيام التي يكثر الكلام عنها، أسأل الله تعالى أن ينفع بها، وأن يجعلها حجةً لنا يوم نلقاه، علماً بأن عملي فيها هو الجمع والترتيب فقط، وقد حرصت على جمع كلام وفتاوى الشيخين عبد العزيز بن باز ومحمد بن عثيمين رحمهما الله تعالى، ربطاً للعامة بأهل العلم الموثوقين، والله المستعان، وإلى الشروع في المقصود:

រាល់ការសសើរទាំងឡាយគឺសំរាប់អល់ឡោះជាម្ចាស់នៃពិភពទាំងឡាយ ហើយសូមអល់អល់ឡោះប្រទានពរជ័យ និងភាពសុខសាន្តដល់ណាពី និងរ៉សូល ដែលល្អជាងគេ។ បន្ទាប់មក:

នេះគឺជាអត្ថបទសង្ខេបដែលខ្ញុំបានចងក្រងវាជាលក្ខណៈសំណួរចម្លើយ ដែលផ្តុកទៅដោយបញ្ហាសំខាន់ៗដែលគេតែងលើកឡើងពាក់ព័ន្ធនឹងការបួស។ ខ្ញុំសុំបួងសួងសុំអំពីអល់ឡោះឲ្យវាផ្តល់ផលប្រយោជន៍ និងជាភស្តុតាងសំរាប់យើងនៅថ្ងៃដែលយើងជួបទ្រង់។ គួររំលឹកថាអ្វីដែលខ្ញុំធ្វើនៅទីនេះគឺគ្រាន់តែជាការប្រមូលផ្តុំ និងរៀបចំប៉ុណ្ណោះ ហើយខ្ញុំបាន

ព្យាយាមប្រមូលផ្តុំប្រសាសន៍ និងការផ្តល់ជាច្បាប់ដោយព្រឹទ្ធាចារ្យទាំងពីរ គឺ សាសនវិទូឥស្លាមអាប់ទុលអាស៊ីស កូន ពើស និង មូហាំម៉ាត់ កូន អូស្មៃមីន ក្នុងបំណងផ្សារភ្ជាប់ទំនាក់ទំនងមនុស្ស សាមញ្ញធម្មតាជាមួយនឹងអ្នកចេះដឹងដែលត្រូវគេជឿទុកចិត្ត។ សូមអល់ឡោះមេត្តាជួយ ហើយតនេះគឺជាការចាប់ផ្តើមចូលខ្លឹមសារដែលជាគោលបំណង៖

**1- តើអ្វីទៅជានិយមន័យនៃការបួស?**

**ច-«បួស» ៖**

-តាមលក្ខណៈភាសាមានន័យថាៈ ការបោះបង់ ការតម។

-តាមលក្ខណៈនៃច្បាប់ឥស្លាមមានន័យថាៈ ការគោរពសក្ការៈទៅចំពោះអល់ឡោះដោយការតមអាហារ ការតមទឹកនិងប្រការទាំងឡាយណាដែលនាំឲ្យខូចបួសចាប់ពីសេតារុណារះ(ហ្វាជើររះ) រហូតដល់ថ្ងៃលិច។

**2- តើច្បាប់ឥស្លាមចែងយ៉ាងដូចម្តេចចំពោះការបួសនៅក្នុងខែរ៉ម៉ាឌន?**

ច-ការបួសនៅក្នុងខែរ៉ម៉ាឌនគឺជាកាតព្វ

កិច្ចមួយដែលអល់ឡោះបានដាក់វាលើ
បណ្តាខ្ញុំរបស់ទ្រង់។
ភស្តុតាងដែលបញ្ជាក់ថាដូចនេះគឺមកអំពី
អាល់គួរអាន អំពីស៊ុណ្ណះ និងការឯកភាព
គ្នារវាងសាសនវិទូឥស្លាម។

-ភស្តុតាងអំពីគួរអានគឺបន្ទូលរបស់
អល់ឡោះថា:
{يَا أَيُّهَا الَّذِينَ آمَنُواْ كُتِبَ عَلَيْكُمُ الصِّيَامُ كَمَا كُتِبَ
عَلَى الَّذِينَ مِن قَبْلِكُمْ لَعَلَّكُمْ تَتَّقُونَ } البقرة183.
មានន័យថា: «ឱបណ្តាអ្នកដែលមាន
ជំនឿ! គេបានដាក់កាតព្វកិច្ចលើពួកអ្នកឲ្យ
បួសដូចដែលគេបានដាក់វាលើពួកអ្នក
ជំនាន់មុនដែរដើម្បីឲ្យពួកអ្នកកោតខ្លាច»។

ជំពូកអាល់ហ្គាការ៉ោះ : 183។

-ភស្តុតាងអំពីស៊ុណ្ណះគឺអាល់ពូខរី និងមូស្លីមបានរាយការណ៍នៅក្នុងគម្ពីរសហេះទាំងពីររបស់ពួកគាត់អំពីហាទីស្ត អាប់ទុលឡោះកូនអ៊ូមើរ(រឌ)ថា រ៉សូលុលឡោះ(សអវ)បានមានប្រសាសន៍ថាៈ

«بُنِيَ الإسلامُ عَلَى خمسٍ: شَهَادَةِ أَنْ لَا إِلَهَ إِلَّا اللَّهُ، وَأَنَّ مُحَمَّدًا رَسُولُ اللَّهِ، وَإِقَامِ الصَّلَاةِ، وَإِيتَاءِ الزَّكَاةِ وَحَجِّ الْبَيْتِ، وَصَوْمِ رَمَضَانَ ». رواه البخاري ومسلم.

មានន័យថាៈ «គេស្ថាបនាឥស្លាមលើមូលដ្ឋានគ្រឹះប្រាំគឺ៖ ការធ្វើសាក្សីថា គ្មានទេម្ចាស់ដែលត្រូវគេគោរពសក្ការៈដ៏ត្រឹមត្រូវលើកលែងតែអល់ឡោះ ហើយមូហាំម៉ាត់

គឺពិតជាអ្នកនាំសាររបស់អល់ឡោះ ការប្រតិបត្តិសឡាត ការបរិច្ចាគហ្សាកាត់ ការធ្វើហាជ្ជី និងការបួសខែរ៉ម៉ាឌន»។

-អ្នកឥស្លាមទាំងអស់បានឯកភាពគ្នា ការបួសខែរ៉ម៉ាឌនគឺជាកាតព្វកិច្ច ហើយអ្នកឥស្លាមណាដែលបដិសេធភាពជាកាតព្វកិច្ចរបស់វានឹងក្លាយជាអ្នកបោះបង់ជំនឿ។

**3- តើអ្វីខ្លះជាលក្ខខណ្ឌនៃការបួស?**

ច-ការបួសគឺជាកាតព្វកិច្ចលើអ្នកដែលគ្រប់តាមលក្ខខណ្ឌខាងក្រោម៖

- អ្នកឥស្លាម

- គ្រប់អាយុ
- មានប្រាជ្ញាស្មារតីល្អធម្មតានិង
- មានលទ្ធភាពបួស។

### 4-តើពេលណាត្រូវនៀតបួស( តាំងចិត្តបួស ) ខែរ៉ម៉ាឌន ?

ច-ចាំបាច់ត្រូវនៀតបួសពេលយប់មុនពេលសេតារុណារះ(មុនពេលហ្វាជើររះ)។ ប្រសិនបើបុគ្គលម្នាក់មិនបាននៀតបួសទេរហូតដល់សេតារុណារះនោះគឺការបួសរបស់គាត់មិនត្រឹមត្រូវនោះទេ។ ភស្តុតាងដែលបញ្ជាក់យ៉ាងដូចនេះគឺមាននៅក្នុងសេចក្តីរាយការណ៍របស់ម៉ាលិក

និងអាន់ណាសាអ៊ី អំពីហាទីស្ហ កូន អ៊ូមើរ (រឌ)ថា រ៉សូលុលឡោះ(សអវ) បានមានប្រសាសន៍ថា:

"لَا يَصُومُ إِلَّا مَنْ أَجْمَعَ الصِّيَامَ قَبْلَ الْفَجْرِ". رواه مالك والنسائي.

មានន័យថា: «បុគ្គលម្នាក់មិនត្រូវបួសទេ លើកលែងតែអ្នកដែលបាននៀតបួសមុនពេលសេតារុណរះ»។ នេះគឺសំរាប់បួសដែលជាកាតព្វកិច្ច ដោយឡែកបួសស៊ូណិត(បួសដោយស្ម័គ្រចិត្ត) គឺអាចនៀតនៅពេលថ្ងៃបាន ដោយផ្អែកលើសេចក្ដីរាយការណ៍របស់មូស្លីមនៅក្នុងគម្ពីរសហេះរបស់គាត់ថា:

ច-តាមលក្ខណៈដែលត្រឹមត្រូវនោះគឺការ នៀតមួយដងនៅដើមខែនោះគ្រប់គ្រាន់ ហើយសំរាប់ការបួសរយៈពេលមួយខែ ហេតុនេះមិនចាំបាច់នៀតនៅរៀងរាល់យប់នោះទេលើកលែងតែមានមូលហេតុដែលគេអនុញ្ញាតឲ្យគាត់ដាច់បួស ហើយ គាត់បានឈប់បួសមួយរយៈនៅពេលថ្ងៃ។ ករណីនេះចាំបាច់ត្រូវនៀតបួសឡើងវិញ។

**❖កំណាត់សំគាល់៖**

ប្រសិនបើអាចនៀតបួសរាល់យប់ បាននោះវាជាការប្រសើរព្រោះចេញផុត អំពីការខ្វែងយោបល់គ្នារវាងសាសនវិទូឥស្លាម។

"أَنَّ النَّبِي صَلَّى اللهُ عَلَيْهِ وَسَلَّمَ دَخَلَ عَلَى عَائِشَةَ رضي الله عنها فَسَأَلَهَا هَلْ عِنْدَهَا شَيْءٌ؟ قَالَتْ: لاَ. فَقَالَ صَلَّى اللهُ عَلَيْهِ وَسَلَّمَ: «إِنِّي إِذًا صَائِمٌ»". رواه مسلم.

មានន័យថា: «ពិតណាស់ណាពី(សអវ) បានចូលជួបអាអ៊ីស្ប៉ះ(រឌអ) ហើយ បានសួរគាត់ថា:«តើអូនមានអ្វីហូបទេ?»។ គាត់បានឆ្លើយថា: គ្មានទេ។ លោក (សអវ)ក៏មានប្រសាសន៍ថា: « បើដូច្នេះ ខ្ញុំបួស»។

**5- តើការនៀតតែមួយដងនៅយប់ដំបូងនៃ ខែរ៉ម៉ាឌនគ្រប់គ្រាន់សំរាប់ការបួសមួយខែ ឬទេ ឬ មួយត្រូវនៀតរាល់យប់?**

**6- តើអាចពឹងផ្អែកលើអាត្យានដែលវិទ្យុខ្លះបានផ្សាយដើម្បីបញ្ជាក់អំពីពេលសេតារុណា (ហ្វាជើរ)ៈ និងថ្ងៃលិចបានឬទេ?**

ច-អាចពឹងផ្អែកបានប្រសិនបើវិទ្យុនេះត្រូវបានគេជឿជាក់។ សាសនវិទូឥស្លាមសៀខ មូហាំម៉ាត់ កូន អ៊ូស្សៃមីន ធ្លាប់បានផ្តល់ជាហ្វាត់វ៉ាដូចខាងលើនេះ។

**7- តើអ្វីខ្លះជាអំណះអំណាងអាចបញ្ជាក់ថាខែរ៉ម៉ាឌនចូលមកដល់នោះ?**

ច-អំណះអំណាងដែលបញ្ជាក់ថាខែរ៉ម៉ាឌនចូលមកដល់នោះមានពីរប្រការគឺ៖

ទីមួយៈ រាប់ខែស្អាក់ហ្គានឲ្យគ្រប់ ៣០ថ្ងៃ (ប្រសិនបើមិនឃើញខែនៅល្ងាច ថ្ងៃទី២៩ ខែស្អាក់ហ្គាន)។

ទីពីរៈ មើលឃើញខ្នើតខែរ៉ម៉ាឌន។

**៨- តើច្បាប់ចែងយ៉ាងណាចំពោះអ្នកដែលបានឃើញខ្នើតខែរ៉ម៉ាឌន ឬខ្នើតខែស្សាវ៉ាល់តែម្នាក់ឯងហើយគេមិនទទួលយកការធ្វើសាក្សីរបស់គាត់?**

ច-គាត់មិនត្រូវបួសហើយក៏មិនត្រូវស្រាយបួសដែរលើកលែងតែជាមួយមនុស្សទូទៅដោយសំអាងលើ សេចក្តីរាយការណ៍ដែលមាននៅក្នុងគម្ពីរហ្ជាមៀក

របស់អាត់តៀរមីត្សីនិងអ្នករាយការណ៍ផ្សេងទៀតថា:

"الصَّوْمُ يَوْمَ تَصُومُونَ". رواه الترمذي وصححه الألباني.

មានន័យថា: ពិតណាស់រ៉សូលុលឡោះ (សអវ)បានមានប្រសាសន៍ថា: « ការបួសគឺនៅថ្ងៃដែលពួកអ្នកទាំងឡាយបួស»។រាយការណ៍ដោយអាត់តៀរមីត្សី ហើយបញ្ជាក់អំពីភាពត្រឹមត្រូវរបស់វាដោយសៀខ អាល់ហ្គានី។និងដោយសារពាក្យថាខែ ជាភាសាអារ៉ាប់គឺ «អាសស្សះរ៍» យកមក អំពីពាក្យថា «អាសស្សឹសរ៉ោះ» មានន័យថា «ល្បីល្បាញ»។ ហេតុនេះប្រសិនបើការចូលខែមនុស្សមិនដឹង

បង្ហាញថាវាមិនទាន់ចូលនោះទេ។ សាសនវិទូឥស្លាម អាប់ទុលអាហ្ស៊ីស កូនហ្គើស ធ្លាប់បានបញ្ចេញជាហ្វាត់វ៉ាដូចនេះ។

**9- តើគេដាក់លក្ខខណ្ឌឲ្យមានសាក្សីប៉ុន្មាននាក់ដើម្បីបញ្ជាក់អំពីការចូលមកដល់នៃខែរ៉ម៉ាឌន និងការចេញទៅវិញរបស់វានោះ?**

ចៈ-គេដាក់លក្ខខណ្ឌសាក្សីតែម្នាក់ប៉ុណ្ណោះដើម្បីបញ្ជាក់ថាខែរ៉ម៉ាឌនចូលមកដល់ដោយសំអាងលើសេចក្តីរាយការណ៍

របស់អាពូដាវូទនិងអ្នកផ្សេងទៀតអំពី ហាទីស្ហ កូន អ៊ូមើរ (រឌអ)ថា:

«تَرَاءَى النَّاسُ الْهِلاَلَ، فَأَخْبَرْتُ رَسُولَ اللَّهِ صَلَّى اللهُ عَلَيْهِ وَسَلَّمَ أَنِّي رَأَيْتُهُ، فَصَامَ وَأَمَرَ النَّاسَ بِالصِّيَامِ» .

رواه أبو داود وغيره. قال الترمذي والعمل عليه عند أكثر أهل العلم.

មានន័យថា: «មនុស្សទាំងឡាយនាំគ្នាចាំមើលខ្នើតខែរ៉ម៉ាឌន ហើយខ្ញុំបានជំរាបរ៉ស៊ូលុលឡោះ(សអវ)ថា ខ្ញុំពិតជាបានឃើញវា ខណៈនោះលោកក៏បួស និងបានប្រើមនុស្សទូទៅឲ្យបួសដែរ»។ លោកអាត់តៀរមីហ្ស៊ីបានមានប្រសាសន៍ថា: ការអនុវត្តរបៀបនេះគឺជាទស្សនៈសាសនវិទូឥស្លាមភាគច្រើន។

ដោយឡែកការធ្វើសាក្សីដើម្បីបញ្ជាក់អំពីការចេញខែរ៉ម៉ាឌននោះគឺចាំបាច់ត្រូវមានពីរនាក់ឡើងទៅ ដោយការឯកភាពគ្នារវាងសាសនវិទូឥស្លាម។

លោកអាត់តៀរមីត្ស៊ីបានមានប្រសាសន៍ថា: «សាសនវិទូឥស្លាមមិនមានការខ្វែងយោបល់គ្នាទេថា គេមិនទទួលយកការធ្វើសាក្សីដើម្បីបញ្ជាក់អំពីការស្រាយបួសឡើយលើកលែងតែមានសាក្សីជាបុរសពីរនាក់»។

**10- តើច្បាប់ឥស្លាមអនុញ្ញាតឲ្យប្រជាជននៃប្រទេសមួយបួសនិងស្រាយបួសដោយ**

## ពឹងផ្អែកលើការគណនាតាមតារាសាស្ត្រ (ដូចជាប្រក្រតិទិន)ឬទេ?

ច-ច្បាប់ឥស្លាមមិនអនុញ្ញាតនោះទេ ដោយសំអាងលើប្រសាសន៍របស់រ៉សូលុលឡោះ(សអវ)ថា:

« صُومُوا لِرُؤْيَتِهِ وَأَفْطِرُوا لِرُؤْيَتِهِ ». رواه مسلم

មានន័យថា: «ចូរពួកអ្នកបួសដោយសារមើលឃើញខ្នើតខែរ៉ម៉ាឌន និងស្រាយបួសវិញដោយសារឃើញខ្នើតខែស្សាវ៉ាល»។រាយការណ៍ដោយមូស្លីម។ នៅក្នុងហាទីស្ហនេះលោកបានផ្សារភ្ជាប់ការចាប់ផ្តើមបួសនិងការស្រាយដោយការមើលឃើញខែ។

**11-តើមនុស្សប្រភេទណាខ្លះដែលច្បាប់ឥស្លាមអនុញ្ញាតឲ្យស្រាយបួស(អាចអត់បួសបាន)នៅក្នុងខែរ៉ម៉ាឌន?**

ច-មនុស្សដែលឥស្លាមអនុញ្ញាតឲ្យស្រាយបួសនៅក្នុងខែរ៉ម៉ាឌនមានច្រើនប្រភេទគឺ:

**ទីមួយ:** អ្នកជម្ងឺដែលការបួសអាចបង្កគ្រោះថ្នាក់ដល់គាត់។

**ទីពីរ:** អ្នកដំណើរ។

ភស្តុតាងដែលបញ្ជាក់ថា មនុស្សពីរប្រភេទខាងលើអាចស្រាយបួសបានគឺបន្ទូលរបស់អល់ឡោះថា:

{ فَمَن شَهِدَ مِنكُمُ الشَّهْرَ فَلْيَصُمْهُ وَمَن كَانَ مَرِيضاً أَوْ عَلَى سَفَرٍ فَعِدَّةٌ مِّنْ أَيَّامٍ أُخَرَ } البقرة185

មានន័យថា: «បុគ្គលណាដែលមានវត្តមានជួបខែរ៉ម៉ាឌននោះចូរឲ្យគេបួស ហើយបុគ្គលណាដែលមានជម្ងឺឬស្ថិតនៅក្នុងការធ្វើដំណើរ (គាត់អាចស្រាយបួសបាន)ប៉ុន្តែត្រូវរាប់ចំនួនថ្ងៃដើម្បីបួសសងនៅថ្ងៃក្រោយ»។

**ទីបី:** ស្ត្រីដែលមានរដូវ និងស្ត្រីដែលមានធ្លាក់ឈាមក្រោយពេលសំរាលកូន។

ភស្តុតាងដែលបញ្ជាក់អំពីបញ្ហានេះ គឺហាទីស្ទដែលរាយការណ៍ដោយអាល់ពូខរី និងមូស្លីមអំពីអាអ៊ីស្យះ(រ.ឱ.អ)ថា:

« كَانَتْ إِحْدَانَا تَحِيضُ عَلَى عَهْدِ رَسُولِ اللَّهِ صَلَّى اللهُ عَلَيْهِ وَسَلَّمَ، فَنُؤْمَرُ بِقَضَاءِ الصَّوْمَ وَلَا تُؤْمَرُ بِقَضَاءِ الصَّلَاة». متفق عليه.

មានន័យថា: «មានស្ត្រីម្នាក់នៃពួកយើងមករដូវនៅជំនាន់រ៉សូលុលឡោះ(សអវ) ហើយគេបានប្រើគាត់ឲ្យប្អូសសងវិញ ប៉ុន្តែមិនបានប្រើឲ្យសឡាតសងវិញនោះទេ»។ រាយការណ៍ដោយអាល់ពូខរី និងមូស្លីម។

ទីមួយ:ស្ត្រីមានផ្ទៃពោះនិងស្ត្រីបំបៅកូន។

ពួកគេបានសំអាងលើភស្តុតាងដែលគេរាយការណ៍អំពីណាពី(សអវ)ថា:

«إِنَّ اللَّهَ وَضَعَ عَنِ الْمُسَافِرِ نِصْفَ الصَّلَاةِ وَالصَّوْمَ، وَعَنِ الْحُبْلَى وَالْمُرْضِعِ». رواه أحمد والترمذي وأوبو داود والنسائي.

មានន័យថា: «ពិតណាស់អល់ឡោះបាន អនុគ្រោះឲ្យអ្នកដំណើរពាក់កណ្តាលនៃ សឡាត(សឡាតបួនរ៉ក្អាត់មកនៅត្រឹមពីរ រ៉ក្អាត់) និងការបួស ហើយក៏បានអនុគ្រោះ ឲ្យស្ត្រីដែលមានផ្ទៃពោះនិងស្ត្រីដែលបំបៅ កូនផងដែរ(អនុញ្ញាតឲ្យស្រាយសិន តែត្រូវបួសសងវិញ)»។ រាយការណ៍ដោយ អះម៉ាត់ អាត់តៀរមីហ្ស៊ី អាពូដាវូទ និង អាន់ណាសាអ៊ី)។

ដល់អ្នកក្រីក្រ»។ លោកបានបញ្ជាក់ថា ច្បាប់នេះវាមិនត្រូវបានគេផ្លាស់ប្តូរទេ វាគឺ សំរាប់បុរសចាស់ជរា និងស្ត្រីចាស់ជរា ដែលគ្មានលទ្ធភាពបួសគឺត្រូវផ្តល់ជាចំណី អាហារដល់អ្នកក្រីក្រម្នាក់ក្នុងមួយថ្ងៃដែល គាត់មិនបានបួស(ត្រូវផ្តល់ជាអង្ករឬអ្វី ដែលជាអាហារសំខាន់ប្រចាំថ្ងៃរបស់ មនុស្សក្នុងមួយថ្ងៃ1/4 កន្តាំងប្រមាណ 0.75 គីឡូក្រាម។សាសនវិទូឥស្លាមខ្លះថា ក្នុងមួយថ្ងៃកន្លះកន្តាំងស្មើនឹង 1.5 គីឡូ ក្រាម ប៉ុន្តែសាសនវិទូភាគច្រើនថា 1/4 កន្តាំង)។

ទីប្រាំ: មនុស្សអសមត្ថភាពក្នុងការបួស ដោយសារចាស់ជរា ឬជម្ងឺដែលគ្មានសង្ឃឹមថាអាចជាឡើងវិញ។

អាល់ពូខរី និងអ្នកផ្សេងទៀតបានរាយការណ៍អំពីហាទីស្ហ កូន អាប់ហ្គើស (រឌអ) ក្នុងការបកស្រាយបន្ទូលរបស់អល់ឡោះថា:

"وَعَلَى الَّذِينَ يُطَوَّقُونَهُ فَلَا يُطِيقُونَهُ فِدْيَةٌ طَعَامُ مِسْكِينٍ"، قَالَ ابْنُ عَبَّاسٍ رضي الله عنهما: " لَيْسَتْ بِمَنْسُوخَةٍ هُوَ الشَّيْخُ الْكَبِيرُ وَالْمَرْأَةُ الْكَبِيرَةُ لَا يَسْتَطِيعَانِ أَنْ يَصُومَا فَيُطْعِمَانِ مَكَانَ كُلِّ يَوْمٍ مِسْكِينًا". رواه البخاري.

មានន័យថា: «ចំពោះពួកអ្នកដែលគ្មានលទ្ធភាពបួសគឺត្រូវផ្តល់ជាចំណីអាហារ

**កំណត់ចំណាំ៖**

សាសនវិទូម្ហូហាំម៉ាត់ កូន អាល់អ៊ូស្សៃមីនបានបញ្ជាក់ថា ពិតណាស់ប្រសិនបើគេកត់ត្រាឲ្យអ្នកជម្ងឺដែលគ្មានសង្ឃឹមថានឹងអាចជានោះទៅជាជាសះស្បើយឡើងវិញ ក៏គេមិនទាមទារឲ្យគាត់បួសសងវិញដែរ ដោយសារកាតព្វកិច្ចរបស់គាត់បានអនុវត្តរួចតាមរយៈការផ្តល់ជាចំណីអាហារនោះៗ

**12-តើមានវិធីសាស្ត្រអ្វីខ្លះក្នុងការផ្តល់ចំណីអាហារចំពោះអ្នកដែលគ្មានលទ្ធភាពបួសនោះ?**

ច-គាត់មានវិធីពីរយ៉ាងគឺ៖

ទីមួយ: គាត់អាចចំអិនអាហាររួច អញ្ជើញអ្នកក្រដើម្បីទទួលទានវា។

ទីពីរ: គាត់អាចបែងចែកអាហារដល់អ្នកក្រីក្រទោះជាអាហារនោះចំអិនរួច ឬមិនទាន់ចំអិនក៏ដោយ(ដូចជាការចែកជាអង្ករជាដើម)។

**13- តើច្បាប់ចែងយ៉ាងណាចំពោះការទទួលទានបាយបួសចំពោះអ្នកដែលចង់បួស?**

ច-ការប្រើឲ្យទទួលទានបាយបួសនៅគឺជាប្រការស៊ូណិត(គប្បីធ្វើ)ដូចដែលសាសនវិទូមូហាំម៉ាត់ កូន លោក សឡុះ

កូន លោក អ៊ូស្តែមីនបានបញ្ចេញជាហ្វាត់វ៉ាបញ្ជាក់យ៉ាងដូច្នេះ។ ដូចគ្នាដែរការទទួលទានបាយបួសនោះគឺគួរធ្វើនៅមួយភាគបីចុងក្រោយនៃយប់(ពេលទៀបភ្លឺមុនពេលហ្វាជើរះ)ដោយសំអាងលើប្រសាសន៍របស់ ហៃ្សទកូន ស្ហាពិត (រ.ឌអ) ថា:

تَسَحَّرْنَا مَعَ رَسُولِ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ ، ثُمَّ قُمْنَا إِلَى الصَّلاةِ ، قَالَ : قُلْتُ : كَمْ كَانَ قَدْرُ ذَلِكَ ؟ قَالَ : قَدْرُ خَمْسِينَ آيَةً. رواه البخاري ومسلم.

មានន័យថា: «ពួកយើងបានពិសារអាហារដើម្បីបួសជាមួយរ៉សូលុលឡោះ(សអវ) បន្ទាប់មកលោកបានទៅសឡាត។ ខ្ញុំបានសួរថា: តើរយៈពេលប៉ុន្មានចន្លោះពេល

អាត្យាននិងពេលពិសារអាហារដើម្បីបួស កាលនោះ? គាត់បានតបថាៈ ប្រមាណជាអាចសូត្របាន៥០អាយ៉ាត់។(រាយការណ៍ដោយអាល់ពូខរីនិងមូស្លីម) និងយោងតាមប្រសាសន៍របស់រ៉សូលុលឡោះ (សអវ)ថាៈ

«لَا تَزَالُ أُمَّتِي بِخَيْرٍ مَا عَجَّلُوا الفِطْرَ وَأَخَّرُوا السَّحُوْرَ». رواه أحمد.

មានន័យថាៈ «ពលរដ្ឋរបស់ខ្ញុំនៅតែស្ថិតនៅក្នុងភាពល្អប្រសើរដរាបណាពួកគាត់នៅប្រញាប់ដើម្បីស្រាយបួស និងពន្យារពេលទទួលទានអាហារនៅពេលយប់ដើម្បីបួស»។(រាយការណ៍ដោយអះម៉ាត់)។

គេចាត់ទុកថាបានទទួលទាន អាហារដើម្បីបួសហើយសំរាប់បុគ្គលដែល បានទទួលទានអាហារឬភេសជ្ជៈបន្តិច បន្តួច ដូចកូនលោកហាជើរបានបញ្ជាក់ នៅក្នុងគម្ពីរហ្សាត់ហ៊ុលហ្គារី។

**14-តើគេដាក់ជាស៊ុណិត(គប្បី)ឲ្យអ្នកបួស ចាប់ផ្ដើមទទួលទានអាហារអ្វីមុនគេនៅ ពេលស្រាយ?**

ច-ការទទួលទានអាហារស្រាយបួសគួរ ចាប់ផ្ដើមដោយផ្លែល្មើ ប៉ុន្តែក្នុងករណីគ្មាន វាទេគប្បីចាប់ផ្ដើមដោយទឹក។

ភស្តុតាងរបស់វាគឺហាទីស្ហអំពីសាល់ម៉ាន កូន អាមៀរ(រឌអ)ថាៈ រ៉សូលុលឡោះ (សអវ)បានមានប្រសាសន៍ថាៈ

«إِذَا كَانَ أَحَدُكُمْ صَائِمًا فَلْيُفْطِرْ عَلَى التَّمْرِ فَإِنْ لَمْ يَجِدْ التَّمْرَ فَعَلَى الْمَاءِ فَإِنَّ الْمَاءَ طَهُورٌ». رواه الخمسة وقال الترمذي : حديث حسن صحيح.

មានន័យថាៈ «នៅពេលបុគ្គលណាម្នាក់នៃពួកអ្នកបានបួសចូរឲ្យគាត់ស្រាយវានឹងផ្លែល្មើ ប៉ុន្តែប្រសិនបើគាត់គ្មានផ្លែល្មើទេ គាត់គួរស្រាយបួសនឹងទឹកព្រោះទឹកគឺស្អាតស្អំ»។ រាយការណ៍ដោយអ្នករាយការណ៍ទាំងប្រាំនាក់ ហើយអាត់តៀរមីត្សីបានអះអាងថា វាគឺល្អ ត្រឹមត្រូវ។

**15-តើអ្វីខ្លះជាប្រការដែលនាំឲ្យខូចបួស?**

ច-ប្រការដែលនាំឲ្យខូចបួសមានច្រើនដូចជា៖

**ទីមួយ: ការទទួលទានអាហារ និងពិសារទឹកដោយចេតនា មិនដោយសារការភ្លេចភ្លាំង។** សាសនវិទូឥស្លាមទាំងអស់បានឯកភាពគ្នាលើបញ្ហានេះ។ អល់ឡោះបានមានបន្ទូលថា:

{ وَكُلُواْ وَاشْرَبُواْ حَتَّى يَتَبَيَّنَ لَكُمُ الْخَيْطُ الأَبْيَضُ مِنَ الْخَيْطِ الأَسْوَدِ مِنَ الْفَجْرِ}البقرة187

មានន័យថា: «ចូរពួកអ្នកទទួលទានអាហារនិងពិសារទឹក(នៅពេលយប់)រហូតដល់អំបោះពណ៌សបានលេចចេញច្បាស់

សំរាប់ពួកអ្នកអំពីអំបោះពណ៌ខ្មៅនៃសេតារុណា(មានន័យថា ចូរទទួលទានអាហារ និងពិសារទឹកតាមចិត្តចុះរហូតដល់ពេលសេតារុណារះពោលគឺហ្វាជើររះមកដល់)។ (ជំពូកអាល់បាការ៉ោះ ១៨៧)

●ការជក់បារីស្ថិតនៅក្នុងប្រភេទនៃការទទួលទានអាហារដែរ(ធ្វើឲ្យខូចបួសដែរ) ដូចដែលសាសនវិទូមូហាំម៉ាត់ គូនអ៊ូស្មៃមីន និងអ្នកផ្សេងទៀតដែលជាអ្នកមានចំណេះដឹងបានបញ្ជាក់ជាហ្វាត់វ៉ាបញ្ជាក់។

ដូចគ្នាដែរ(ខូចបួសដែរ)ការបញ្ចូលសារធាតុអ្វីម្យ៉ាងចូលក្នុងច្រមុះ ដូចជាថ្នាំ

បាញ់បញ្ចូលក្នុងរន្ធច្រមុះ។ល។ ដូចនេះហើយដែលសាសនវិទូឥស្លាមពីររូបគឺ អាប់ទុលអាហ្ស៊ីសកូនពើស និងមូហាំម៉ាត់កូន អ៊ីស្ហែមីនបានបញ្ចេញហ្វាត់វ៉ា ដោយផ្អែកលើហាទីស្ហទ្បាគីត កូន ស្ហព្ហរ៉ោះថារ៉ស៊ូលុលឡោះ(សអវ)បានមានប្រសាសន៍ថា:

« وَ بَالِغْ فِي الِاسْتِنْشَاقِ إِلَّا أَنْ تَكُونَ صَائِمًا ». رواه أبو داود والترمذي والنسائي، وصححه الترمذي.

មានន័យថា: «ហើយចូរអ្នកបឺតទឹកបញ្ចូលក្នុងច្រមុះឲ្យជ្រៅ(ពេលយកវូហ្ទុ)លើកលែងតែពេលអ្នកបួស»។ រាយការណ៍ដោយអាពូដាវូទ អាត់តៀរមីត្ស៊ី និងអាន់ណាសាអ៊ី

ហើយអាត់តៀរមីត្បីបាន បញ្ជាក់ថា ហាទីស្នូនេះត្រឹមត្រូវ។

ដោយ ឡែកការប្រើថ្នាំបន្តក់ចូកក្នុង ភ្នែកមិនធ្វើឲ្យដាច់បួសនោះទេ ដូចដែល សាសនវិទូអាប់ទុលអាហ្ស៊ីសក្ងួនពើស និងមូហាំម៉ាត់ ក្ងួន អ៊ីស្នៃមីនផ្លាប់បាន បញ្ចេញហ្វាត់វ៉ាបញ្ជាក់។

**ទីពីរៈអ្វីៗទាំងអស់ដែលមានលក្ខណៈ ដូចការទទួលទានអាហារ និងការពិសារ** ទឹកក្នុងការធ្វើឲ្យរាងកាយមានកម្លាំង រឹងមាំដូចជាការចាក់ថ្នាំជំនួសអាហារ ឬថ្នាំកម្លាំង។ល។ ដូចដែល សាសនវិទូ

អាប់ទុលអាហ្ស៊ីសកូនពើស និងមូហាំម៉ាត់
កូន អ៊ីស្ទែមីនធ្លាប់បានបញ្ឈាក់។

**ទីបី:ការរួមដំណេកដោយការបញ្ចូល**
ប្រដាប់ភេទបុរសទៅក្នុងប្រដាប់ភេទ
ស្ត្រី។ នេះគឺមានការឯកភាពគ្នា
ទាំងអស់រវាងសាសនវិទូឥស្លាម ហើយ
ទន្ទឹមនឹងការធ្វើឲ្យដាច់បួសនោះវាក៏ត្រូវ
ពិន័យដោយការដោះលែងទាសករម្នាក់
ឲ្យមានសេរីភាព ហើយបុគ្គលណាគ្មាន
លទ្ធភាពទេគឺត្រូវបួសពីរខែជាប់គ្នា ហើយ
បើបុគ្គលណាគ្មានលទ្ធភាពទៀតគឺត្រូវ
ផ្តល់អាហារដល់អ្នកក្រីក្រចំនួន៦០នាក់។

ទីបួនៈ ការជប់យកឈាមខ្មៅចេញពីក្បាល។ ដូចគ្នាដែរការបរិច្ចាគឈាមច្រើននិងការហូរឈាមច្រើនដោយសំអាងលើប្រសាសន៍របស់រ៉សូលុលឡោះ(សអវ)ថាៈ

«أَفْطَرَ الْحَاجِمُ وَالْمَحْجُومُ». رواه البخاري.

មានន័យថាៈ «អ្នកជប់យកឈាមខ្មៅចេញពីក្បាលឲ្យអ្នកដទៃនិងអ្នកឲ្យគេជប់យកឈាមខ្មៅនោះគឺដាច់បួស»។ រាយការណ៍ដោយអាល់ពូខរី។

ដូច្នេះហើយដែលសាសនវិទូអាប់ទុលអាហ្ស៊ីសកូនពើស និងមូហាំម៉ាត់កូន អ៊ីស្ហែមីនធ្លាប់បានបញ្ចេញជាហ្វាត់វ៉ានោះ។

ទីប្រាំ: មានឈាមរដូវ និងធ្លាក់ឈាមក្រោយសំរាលសំរាប់ស្ត្រី។ នេះគឺនាំឲ្យខូចបួសដោយមានការឯកភាពរវាងសាសនវិទូឥស្លាម។

ពិតណាស់អ៊ីម៉ាំអាល់ពូរីបានរាយការណ៍អំពីហាទីស្អាអាអ៊ីស្ស៊ុះ(រឌអ)ថា ពិតប្រាកដណាពី(សអវ)បានមានប្រសាសន៍ថា:

« أَلَيْسَ إِذَا حَاضَتْ لَمْ تُصَلِّ وَلَمْ تَصُمْ؟»

មានន័យថា: «តើស្ត្រីនៅពេលមានរដូវគាត់មិនត្រូវបួសនិងមិនសឡាតមែនទេ?»

ដោយឡែកស្ត្រីមួយចំនួនដែលប្រើថ្នាំដើម្បីទប់រដូវក្នុងខែរ៉ម៉ាឌននោះសាសនវិទូ មូហាំម៉ាត់កូនអ៊ូស្អៃមីន បានមានប្រសាសន៍ថា: តាមយោបល់របស់ខ្ញុំនៅ

ក្នុងបញ្ហានេះគឺស្រ្តីមិនគប្បីប្រើថ្នាំដើម្បីការពារមិនឲ្យមានរដូវនៅក្នុងខែរ៉ម៉ាឌននោះទេ ហើយរាល់ការសរសើរទាំងឡាយគឺសំរាប់អល់ឡោះចំពោះលទ្ធភាពរបស់ទ្រង់និងគតិបណ្ឌិតរបស្រង់។

**ទីប្រាំមួយ: ក្អួតដោយចេតនាដោយ** សំអាងលើហាទីស្ហដែលគេបានរាយការណ៍អំពីណាពី(សអវ)ថា:

« مَنْ ذَرَعَهُ الْقَيْءُ ، فَلَيْسَ عَلَيْهِ قَضَاءٌ ، وَمَنِ اسْتَقَاءَ عَمْدًا فَلْيَقْضِ». رواه أبو داو والترمذي وغيرهم.

មានន័យថា: «បុគ្គលណាដែលក្អួតចេញមកដោយឯកឯងនោះគឺមិនត្រូវបួសសង

នោះទេ ហើយបុគ្គលណាដែលធ្វើឲ្យក្អួត ដោយខ្លួនឯងគាត់ត្រូវបួសសងវិញ»។

រាយការណ៍ដោយអាពូដាវូទ អាត់តៀរមីហ្ស៊ីនិងអ្នកផ្សេងទៀត ហើយ ដូច្នេះហើយដែលសាសនវិទូ អាប់ទុល អាហ្ស៊ីសកូនពើស និងមូហាំម៉ាត់ កូន អ៊ុស្តៃមីនធ្លាប់បានបញ្ចេញជាហ្វាត់វ៉ា។

**ទីប្រាំពីរៈ ការធ្វើឲ្យចេញទឹកកាម** ដោយដឹងខ្លួន ទោះជាតាមរយៈការថើប ឬ ការស្ទាបអង្អែល ឬវិធីសាស្ត្រផ្សេងៗ ទៀត ដោយសំអាងលើប្រសាសន៍របស់ រ៉ស៊ូលុលឡោះ(សអវ)នៅក្នុងហាទីស្ហ គុតស៊ីមួយថាៈ

« يَتْرُكُ طَعَامَهُ وَشَرَابَهُ وَشَهْوَتَهُ مِنْ أَجْلِي». رواه البخاري ومسلم.

មានន័យថា: « (អ្នកបួស)គាត់បោះបង់អាហាររបស់គាត់ បោះបង់ទឹករបស់គាត់ និងតណ្ហារបស់គាត់ដើម្បីយើង»។ រាយការណ៍ដោយអាល់ពូខរី និងមូស្លីម។

អ៊ីបនូគូហ្សាម៉ះបានរំលឹកនៅក្នុងគម្ពីរអាល់មូគនីថា: ពិតណាស់បុគ្គលណាចេញទឹកកាមដោយសារការថើប ឬការបបោសអង្អែលនោះវានាំឲ្យខូចបួសដោយគ្មានការខ្វែងយោបល់គ្នាទេតាមដែលគាត់ដឹង។ ដូចគ្នានេះដែរដែលសាសនវិទូមូហាំម៉ាត់កូនអាល់អ៊ូស្វៃមីនបានបញ្ជាញជាហ្វាត់វ៉ានោះ។

**ទីប្រាំបី: ការបឺតយកផ្សែងខ្លឹមចន្ទន៍** ដោយចេតនាដោយឲ្យវាចូលទៅក្នុងពោះ ព្រោះវាមានសារធាតុជាបំនែកតូចៗ។

ដូច្នេះហើយដែលសាសនវិទូមូហាំម៉ាត់ កូន អ៊ូស្សៃមីនធ្លាប់បានផ្តល់ជា ហ្វាត់វ៉ា។

**ទីប្រាំបួន: ការលាងឈាម។** ប្រសិនបើមានការផ្លាស់ប្តូរឈាមឬមានបន្ថែម សារធាតុបំប៉នជាលក្ខណៈអាហារ។ ដូច្នេះហើយដែលសាសនវិទូ អាប់ទុល អាហ្ស៊ីសកូនពើស និងមូហាំម៉ាត់កូន អ៊ូស្សៃមីន ធ្លាប់បានផ្តល់ជាហ្វាត់វ៉ា។

**កំណាត់សំគាត់:**

-ប្រសិនបើគ្រាន់តែក្លិនផ្សែងខ្លឹមចន្ទន៍នោះនោះមិនខូចបួសទេ។

-ចំពោះគ្រឿងក្រអូប ដូចជាទឹកអប់ ឬគ្រឿងក្រអូបផ្សេងៗទៀត ដែលគ្មានបំនែកសារជាតុរានៅក្នុងនោះទេ មិនធ្វើឲ្យខូចបួសទេ។

**ជាទីបញ្ចប់:**

សាសនវិទូ មូហាំម៉ាត់ កូន អ៊ូស្មៃមីន បានរំលឹកថា ប្រការដែលនាំឲ្យខូចបួសខាងលើមិនធ្វើឲ្យអ្នកបួសខូចបួសទេលើកលែងតែមានលក្ខខណ្ឌបីគឺ៖

ទីមួយ: អ្នកប្រព្រឹត្តដឹងអំពីច្បាប់របស់វានិងដឹងអំពីពេលវេលា។

ទីពីរ: អ្នកប្រព្រឹត្តនៅដឹងថាគាត់កំពុងបួស(មិនភ្លេច)។

ទីបី: អ្នកប្រព្រឹត្តជាអ្នកជ្រើសរើសអនុវត្តវាដោយខ្លួនឯង (គ្មានការគាបសង្កត់)។

**16-តើច្បាប់ឥស្លាមចែងយ៉ាងណាចំពោះអ្នកដែលស្រាយបួសដោយចេតនា ដោយគ្មានមូលហេតុស្របច្បាប់នោះ?**

ច-ការធ្វើដូចនោះគឺស្ថិតនៅក្នុងគ្រោះថ្នាក់ធំណាស់ ព្រោះមានហាទីស្អំពីអាពូ អ៊ូម៉ា

ម៉ះ(រឌអ)ថា ខ្ញុំបានលឺរ៉ស៊ូលុលឡោះ (សអវ)មានប្រសាសន៍ថា:

« بَيْنَا أَنَا نَائِمٌ إِذْ أَتَانِي رَجُلَانِ فَأَخَذَا بِضَبْعَيَّ» وَسَاقَ الْحَدِيثَ، وَفِيهِ قَالَ: " ثُمَّ انْطَلَقَا بِي فَإِذَا قَوْمٌ مُعَلَّقُونَ بِعَرَاقِيبِهِمْ، مُشَقَّقَةٌ أَشْدَاقُهُمْ تَسِيلُ أَشْدَاقُهُمْ دَمًا، قُلْتُ: «مَنْ هَؤُلَاءِ؟» قَالَ: هَؤُلَاءِ الَّذِينَ يُفْطِرُونَ قَبْلَ تَحِلَّةِ صَوْمِهِمْ». رواه النسائي في الكبرى وغيره وصححه الذهبي.

មានន័យថា: «នៅពេលខ្ញុំកំពុងសំរាន្ត ស្រាប់តែមានបុរសពីរនាក់បានមកជួបខ្ញុំ ហើយបានកាន់ស្មាទាំងពីររបស់ខ្ញុំ»។ នៅក្នុងនោះលោក បានមានប្រសាសន៍ ថា: « ក្រោយមកពួកគេទាំងពីរបាននាំខ្ញុំ ទៅស្រាប់តែខ្ញុំបានឃើញក្រុមមួយដែល

ត្រូវគេចងជើងព្យួរឡើងលើ ហើយត្រូវគេវាយបំបែកផ្កាមធ្វើឲ្យហូរឈាម»។ ខ្ញុំបានសួរថា: តើពួកគេជានរណា? គេបានឆ្លើយតបថា: «ពួកគេគឺជាពួកអ្នកស្រាយបួសមុនពេលដល់វេលាត្រូវស្រាយ»។ រាយការណ៍ដោយ អាន់ណាសាអ៊ី នៅក្នុងស៊ូណាន់អាល់កុបរ៉ និងអ្នកផ្សេងទៀត ហើយត្បាហាពីបានបញ្ជាក់ថា ហាទីស្ហនេះត្រឹមត្រូវ។

**17-តើច្បាប់ឥស្លាមចែងយ៉ាងណាចំពោះការប្រើឈើមីសវ៉ាក (ឬច្រាសដុសធ្មេញ) នៅពេលថ្ងៃនៃខែរ៉ម៉ាឌន?**

ច-វាជាប្រការស៊ុណ្ណះ(គប្បីធ្វើ) ព្រោះមាន ហាទីស្ហដែលរាយការណ៍ដោយអាល់ពូខរី អំពីអាអ៊ីស្សះ(រឌអ)ថា ពិតណាស់ណាពី (សអវ)បានមានប្រសាសន៍ថា:

« السِّوَاكُ مَطْهَرَةٌ لِلْفَمِ، مَرْضَاةٌ لِلرَّبِّ». رواه البخاري

មានន័យថា: «ការដុសធ្មេញដោយប្រើ ឈើមីសវ៉ាកធ្វើឲ្យមាត់ស្អាត និងធ្វើឲ្យ ម្ចាស់(អល់ឡោះ)ពេញចិត្ត»។ រាយការណ៍ ដោយអាល់ពូខរី។

**18-តើច្បាប់ឥស្លាមចែងយ៉ាងណាចំពោះ ឬសរបស់អ្នកដែលគេអាគ្យានស៊ីពោះ ហើយគាត់នៅមានជូនូប(រួមដំណេករួច មិនទាន់បានងូតទឹកស្រាប់តែគេអាគ្យាន)?**

ច-តាមលក្ខណៈត្រឹមត្រូវនោះគឺ ការបួស របស់គាត់ត្រឹមត្រូវ។ សាសនវិទូឥស្លាម មួយចំនួនបានពាំនាំនូវពាក្យឯកភាពគ្នារវាងសាសនវិទូឥស្លាមទាំងអស់លើបញ្ហានេះ។

ភស្តុតាងដែលបញ្ជាក់អំពីបញ្ហានេះគឺ ហាទីស្ហនៅក្នុងសហេះអាល់ពូខរី និង មូស្លីមអំពីអាអ៊ីស្សះ(រឌអ)ថាៈ

« أَشْهَدُ عَلَى رَسُولِ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ أَنَّهُ كَانَ لَيُصْبِحُ جُنُبًا مِنْ جِمَاعٍ غَيْرِ احْتِلَامٍ ثُمَّ يَصُومُ».

رواه البخاري ومسلم.

មានន័យថាៈ «ខ្ញុំសូមធ្វើសាក្សីចំពោះរ៉សូលុលឡោះ(សអវ)ថា លោកធ្លាប់ពេលស៊ូ

ពោះ(ពេលសេតារុណារ:)មកដល់ហើយ លោកមានជួន្ទបដោយការរួមដំណេក ជាមួយភរិយាមិនមែនដោយការគេង យល់សប្តិ៍ទេហើយក្រោយមកលោកបាន បួស»។ រាយការណ៍ដោយអាល់ពួខរី និង មូស្លីម។

ដូចគ្នាដែរស្ត្រីដែលអស់រដូវឬឈប់ ធ្លាក់ឈាមក្រោយសំរាលមុនពេលសេតា រុណារ:(ហ្វាជើររ:) នាងមានកាតព្វកិច្ចត្រូវ បួសទោះបីនាងមិនទាន់បានងូតទឹកលើក លែងតែក្រោយពេលសេតារុណារ: (ហ្វាជើររ:)ក៏ដោយ។

**19-តើច្បាប់ឥស្លាមចែងយ៉ាងណាចំពោះប្រើថ្នាំជាលក្ខណៈស្រ្តាយហ្គូតសំរាប់អ្នកបួស(ដូចជាប្រេងខ្យល់ជាលក្ខណៈបំពង់ហើតជាដើម)?**

ច-តាមលក្ខណៈដែលត្រឹមត្រូវនោះគឺវាមិនធ្វើឲ្យខូចបួសទេ ព្រោះស្រ្បាយវាហ្សតមិនទៅដល់ក្នុងពោះទេ។
ការផ្តល់ហ្វាត់វ៉ាដូចនេះហើយដែលសាសនវិទូឥស្លាមពីររូបគឺលោក អាប់ទុលអាហ្សីស កូន ពើស និង លោក មូហាំម៉ាត់ កូនអ៊ូស្លៃមីនបានបញ្ជាក់នោះ។

**20-តើច្បាប់ឥស្លាមចែងយ៉ាងណាចំពោះការឆ្លុះទ្វារពះសំរាប់អ្នកបួស?**

ច-តាមលក្ខណៈដែលត្រឹមត្រូវនោះគឺវាមិន ធ្វើឲ្យខូចបួសទេ លើកលែងតែគេដាក់ ជាមួយឧបករណ៍ឆ្លុះនោះនូវសារធាតុ ខ្លាញ់បំប៉នកម្លាំងដើម្បីសំរួលដល់ការ បញ្ចូលវា។ ករណីនេះវាធ្វើឲ្យខូចបួស ដោយសារសារធាតុនេះ មិនមែនដោយ សារការបញ្ចូលឧបករណ៍ឆ្លុះនោះទេ។ ដូចនេះហើយសាសនវិទូឥស្លាមមួហាំម៉ាត់ កូនអ៊ូស្មៃមីនបានផ្តល់ជាហ្វាត់វ៉ានោះ។

**21-តើច្បាប់ឥស្លាមចែងយ៉ាងណាចំពោះ ប្រើថ្នាំជាលក្ខណៈគ្រាប់សំរាប់លាប( ដូច**

**ជាថ្នាំលាបឬឡេលាបស្បែកឬប្រេងសំរាប់លាបស្បែក) ចំពោះអ្នកបួសអ្នកបួស?**

ចៈ-មិនធ្វើឲ្យខូចបួសទេ ព្រោះវាមិនមែនជាការពិសារអាហារឬទឹក ហើយក៏មិនស្ថិតនៅក្នុងន័យអាហារនិងទឹកដែរ។ ដូចគ្នាដែរការបិទវត្ថុផ្សេងៗដើម្បីព្យាបាលនោះ។

**22-តើច្បាប់ឥស្លាមចែងយ៉ាងណាចំពោះការបាញ់ថ្នាំសុលតាមរន្ធគូថចំពោះអ្នកបួស?**

ចៈ-តាមលក្ខណៈដែលត្រឹមត្រូវនោះគឺវាមិនធ្វើឲ្យខូចបួសទេព្រោះវាមិនផ្តល់កម្លាំង(ឬអាហារ)ដល់ខ្លួនប្រាណទេផ្ទុយទៅវិញ

វាបញ្ចេញកាកសំណល់ផ្សេងៗដែលមាន
នៅក្នុងរាងកាយ។
ដូចនេះហើយសាសនវិទូឥស្លាមមួហាំម៉ាត់
កូនអ៊ូស្ហៃមីនបានផ្តល់ជាហ្វាត់វ៉ាប្រសិនបើ
វាជាថ្នាំធម្មតាមិនមានសារធាតុប៉ូវកម្លាំង
ឬសារធាតុជាអាហារ។

**23-តើច្បាប់ឥស្លាមចែងយ៉ាងណាចំពោះ
សុលថ្នាំគ្រាប់ចំពោះអ្នកបួស?**

ច-ការសុលថ្នាំគ្រាប់មិនធ្វើឲ្យខូចបួសទេ។
ដូចនេះហើយសាសនវិទូឥស្លាមមួហាំម៉ាត់
កូនអ៊ូស្ហៃមីនបានផ្តល់ជាហ្វាត់វ៉ា ព្រោះវា
ផ្ទុកសារធាតុថ្នាំ មិនមែនដូចជាការទទួល

ទាន អាហារឬពិសារទឹកនោះទេ ហើយក៏មិនស្ថិតនៅក្នុងន័យដូចគ្នាដែរ។

**24-តើការនិយាយដើមគេនិងការមួលបង្កាច់គេធ្វើឲ្យខូចបួសឬទេ?**

ច-មិនធ្វើឲ្យខូចបួសទេ ប៉ុន្តែវាធ្វើឲ្យខាតបង់ផលបុណ្យរបស់អ្នកបួស។ អាពូហ៊ូរ៉យរ៉ោះ(រឌអ)បានរាយការណ៍ថា: ណាពី(សអវ)បានមានប្រសាសន៍ថា:

« مَنْ لَمْ يَدَعْ قَوْلَ الزُّورِ وَالْعَمَلَ بِهِ ، فَلَيْسَ لِلَّهِ حَاجَةٌ فِيْ أَنْ يَدَعَ طَعَامَهُ وَشَرَابَهُ ». رواه البخاري.

មានន័យថា: «បុគ្គលណាហើយមិនបោះបង់ចោលពាក្យសំដីភូតកុហក ហើយនៅ

អនុវត្តវានោះ អល់ឡោះមិនត្រូវការទេ ការបោះបង់អាហារនិងទឹករបស់គាត់ (បួសរបស់គាត់)»។ រាយការណ៍ដោយ អាល់ពូខរី។

**25-តើគេត្រូវរំលឹកអ្នកបួសដែលទទួលទានអាហារឬពិសារទឹកដោយភ្លេចខ្លួនឬទេ?**

ចៈ-បាទគឺត្រូវរំលឹកគាត់។ សាសនវិទូឥស្លាមលោកអាល់អ៊ូស៊ៃមីន បានលើកយកភស្តុតាងបញ្ជាក់អំពីបញ្ហានេះដោយហាទីស្ទដែលរាយការណ៍ដោយ អាល់ពូខរី និងមូស្លីមនៅក្នុងគម្ពីរសហេះរបស់ពួកគាត់ទាំងពីរថា ពិតណាស់ណាពី

(សអវ)បានមានប្រសាសន៍នៅក្រោយពេលលោកបានភ្លេចនៅក្នុងសឡាតរបស់លោកថាៈ

« فَإِذَا نَسِيتُ فَذَكِّرُونِي ». رواه البخاري ومسلم.

មានន័យថាៈ «នៅពេលដែលខ្ញុំភ្លេចនោះចូរពួកអ្នករំលឹកខ្ញុំ»។ រាយការណ៍ដោយអាល់ពូខរី និងមូស្លីម។

ហើយគេក៏បានយកភស្តុតាងមួយទៀតមកបញ្ជាក់ដែរគឺប្រសាសន៍របស់រ៉សូលុលឡោះ(សអវ)ថាៈ

« مَنْ رَأَى مِنْكُمْ مُنْكَرًا ، فَلْيُغَيِّرْهُ بِيَدِهِ ، فَإِنْ لَمْ يَسْتَطِعْ فَبِلِسَانِهِ ، فَإِنْ لَمْ يَسْتَطِعْ ، فَبِقَلْبِهِ ، وَذَلِكَ أَضْعَفُ الإِيمَانِ ». رواه مسلم.

មានន័យថា: «នៅពេលបុគ្គលណាម្នាក់នៃពួកអ្នកឃើញទង្វើខុសឆ្គងចូរកែប្រែវានឹងដៃរបស់គាត់។ ប្រសិនបើគាត់គ្មានលទ្ធភាពទេត្រូវកែវានឹងអណ្តាតរបស់គាត់។ ប្រសិនបើនៅតែគ្មានលទ្ធភាពទៀត គឺត្រូវកែប្រែវាដោយចិត្តរបស់គាត់ ហើយនេះគឺខ្សោយបំផុតនៃជំនឿ»។ រាយការណ៍ដោយមូស្លីម។

**26-បុគ្គលម្នាក់បានស្លាប់ ហើយគាត់ជំពាក់បួសតើករណីណាដែលសាច់ញ្ញាត្តអាណាព្យាបាលគាត់ត្រូវបួសជំនួសគាត់?**

ច-បញ្ហានេះសាសនវិទូឥស្លាមលោកមូហាំម៉ាត់ កូន អ៊ូស្វៃមីនបានអធិប្បាយបញ្ជាក់

ដូចតទៅ៖

**ករណីទីមួយៈ** ប្រភេទអ្នកជម្ងឺដែលឈឺហើយគ្មានសង្ឃឹមថានឹងអាចជាសះស្បើយឡើងវិញ។ អ្នកជម្ងឺប្រភេទនេះគេត្រូវផ្តល់អាហារដល់អ្នកក្រីក្រ(ក្នុងមួយថ្ងៃ 1/4កន្តាំង) មិនត្រូវបួសសងជំនួសគាត់នោះទេ។

**ករណីទីពីរៈ** ប្រភេទអ្នកជម្ងឺដែលឈឺហើយសង្ឃឹមថានឹងអាចជាសះស្បើយឡើងវិញបាន គឺគាត់ត្រូវរាប់ថ្ងៃដែលមិនបានបួសទុកដើម្បីបួសសងវិញ ប៉ុន្តែប្រសិនបើគេកត់ត្រាឲ្យគាត់ឈឺរហូតដល់គាត់ស្លាប់(គ្មានពេលជាដើម្បីបួសសង)។ ករណានេះគឺគាត់គ្មានបាបកម្មឡើយ(មិន

ចាំបាច់បួសសងជំនួសគាត់ទេ) ព្រោះគាត់បានស្លាប់មុនពេលដែលគាត់មានលទ្ធភាពបួសសង។

**ករណីទីបី:** ប្រភេទអ្នកជម្ងឺដែលឈឺហើយសង្ឃឹមថានឹងអាចជាសះស្បើយឡើងវិញហើយអស់ឡោះបានឲ្យគាត់ជាសះស្បើយពីជម្ងឺ ឬអ្នកដំណើរដែលដាច់បួសហើយមិនបានសងដោយការធ្វេសប្រហែសរបស់គាត់ខណៈដែលគាត់មានលទ្ធភាពបួសរហូតដល់ស្លាប់។ ករណីនេះទើបអាណាព្យាបាលត្រូវបួសសងជំនួសគាត់។

## 27-តើការបួសស៊ូណិត(ស្ម័គ្រចិត្ត)ប្រភេទណាដែលល្អជាងគេ?

ច-អាល់ពូខរី និងមូស្លីមបានរាយការណ៍អំពីហាទីស្អាប់ទុលឡោះកូនអាំរ៍(រឌអ) ថា: ពិតណាស់ណាពី(សអវ)បានមានប្រសាសន៍ថាទៅកាន់គាត់ថា:

« صُمْ يَوْمًا وَأَفْطِرْ يَوْمًا فَذَلِكَ صِيَامُ دَاوُدَ عَلَيْهِ السَّلَام وَهُوَ أَفْضَلُ الصِّيَامِ فَقَالَ عَبْد الله: إِنِّي أُطِيقُ أَفْضَلَ مِنْ ذَلِكَ، فقَالَ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ لَا أَفْضَلَ مِنْ ذَلِكَ». رواه البخاري ومسلم.

មានន័យថា: «ចូរអ្នកបួសមួយថ្ងៃស្រាយមួយថ្ងៃ ដោយសារនោះគឺជាបួសរបស់ណាពីដាវូទ(អស) ហើយវាគឺជាបួសដែល

ល្អជាងគេ»។ អាប់ទុលឡោះ(រ៉ឌអ)បាន មានប្រសាសន៍ទៅកាន់ណាពីថា: ខ្ញុំមានលទ្ធភាពតើមានបួសល្អជាងនេះទេ? លោកក៏បានតបថា: «គ្មានបួសណាល្អជាងនោះទេ»។ រាយការណ៍ដោយអាល់ពូខរី និងមូស្លីម។

28-តើអ្វីទៅជៀកតីភាព្វ?

ច-សាសនវិទូឥស្លាមមូហាំម៉ាត់កូនអ៊ូស្មៃមីនបានឲ្យនិយមន័យថា វាគឺជាការស្ថិតនៅក្នុងម៉ាស្ជិតដើម្បីធ្វើការគោរពសក្ការៈ(អ៊ីប៉ាហ្ទាត់)ទៅចំពោះអល់ឡោះ។

## 29-តើច្បាប់ឥស្លាមចែងយ៉ាងណាចំពោះការអៀកតីកាហ្វ?

ច-វាជាប្រការស៊ុណ្ណះដោយឯកភាពគ្នារវាងសាសនវិទូឥស្លាម។ អល់ឡោះបានមានបន្ទូលថា:

{أَن طَهِّرَا بَيْتِيَ لِلطَّائِفِينَ وَالْعَاكِفِينَ وَالرُّكَّعِ السُّجُودِ} البقرة125

មានន័យថា: «(យើងបានដាក់បទបញ្ជាដល់ពួកគេទាំងពីរនាក់គឺអ៊ីព្រហ៊ីមនិងអ៊ីស្មាអែល)ឲ្យសំអាតគេហដ្ឋានរបស់យើងសំរាប់អ្នកតវ៉ាហ្វ(អ្នកដើរប្រទក្សិណជុំវិញកាក់ហ្ពះ) អ្នកអៀកតីកាហ្វនិងអ្នករូកុនិង

ស៊ូជោគ(អ្នកសទ្បាគ)»។
(ជំពូកអាល់ហ្គាការ៉ោះ ១២៥)

ហើយមានហាទីស្ហនៅក្នុងគម្ពីរសហេះ អាល់ ពូខរី និងមូស្លីមនិងគម្ពីរផ្សេងទៀតថាៈ លោក(សអវ)ធ្លាប់អៀកតីកាហ្វនៅដប់យប់ចុងក្រោយនៃខែរ៉ម៉ាឌន។

សាសនវិទូឥស្លាម លោកអាប់ទុលអាហ្សីសកូនពើសបានមានប្រសាសន៍នៅក្នុងហ្វាត់វ៉ារបស់គាត់(១៥/៤៣៧)ថាៈ គ្មានការមន្ទិលសង្ស័យទេថាការអៀកតីកាហ្វនៅក្នុងម៉ាស្ជិតគឺជាទង្វើនាំឲ្យខិតជិតអល់ឡោះមួយនៃបណ្ដាទង្វើទាំងឡាយដែលនាំឲ្យខិតជិតអល់ឡោះហើយការធ្វើ

វានៅក្នុងខែរ៉ម៉ាឌនវាល្អជាងខែផ្សេងៗ ទៀតដោយយោងតាមបន្ទូលរបស់អល់ឡោះ ថា:

{وَلاَ تُبَاشِرُوهُنَّ وَأَنتُمْ عَاكِفُونَ فِي الْمَسَاجِدِ} البقرة187.

មានន័យថា: «ចូរពួកអ្នកកុំប៉ះពាល់ពួកនាង(កុំប៉ះពាល់ភរិយា)ខណៈពេលដែលពួកអ្នកកំពុងអ៊ៀកតីកាហ្វនៅក្នុងម៉ាស្ជិត»។ (ជំពូកអាល់ហ្គាការ៉ោះ ១៨៧) និងយោងតាមទង្វើរបស់ណាពីដែលលោកតែងតែអ៊ៀកតីកាហ្វនៅដប់យប់ចុងក្រោយនៃខែរ៉ម៉ាឌន ហើយលោកបានអាក់ខានមិនបានអ៊ៀកតីកាហ្វតែមួយដង

គត់ ហើយបានអៀកតីកាហ្វវិញនៅក្នុងខែស្សាវ៉ាល។

គោលបំណងនៃការអៀកតីកាហ្វគឺការយកពេលវេលាសំរាប់តែការធ្វើការគោរពសក្ការៈទៅចំពោះអល់ឡោះ និងការនៅទីន្លែងស្ងប់ស្ងាត់ជាមួយនឹងការគោរពសក្ការៈទៅចំពោះអល់ឡោះ ហើយនោះគឺជាការនៅកន្លែងស្ងប់ស្ងាត់ដោយស្របច្បាប់ឥស្លាម។

មានសាសនវិទូឥស្លាមមួយចំនួនទៀតបានឲ្យនិយមន័យនៃការអៀកតីកាហ្វថា: ជាការផ្តាច់ទំនាក់ទំនងជាមួយកិច្ចការរវល់ទាំងឡាយដែលរំខានដល់ការប្រតិបត្តិតាមបទបញ្ជាអល់ឡោះ និងការគោរព

សក្ការៈទៅចំពោះទ្រង់។
វាជាទង្វើដែលគេប្រើទោះជានៅក្នុងខែរ៉ម៉ាឌនឬខែផ្សេងដូចបានបញ្ជាក់រួច ហើយប្រសិនបើរួមជាមួយការបួសនោះវាកាន់តែប្រសើរ ប៉ុន្តែប្រសិនបើបុគ្គលម្នាក់អៀកតីកាហ្វដោយមិនបានបួសនោះក៏គ្មានបញ្ហាដែរ ប្រសិនផ្អែកតាមទស្សនៈដែលមានលក្ខណៈត្រឹមត្រូវជាងនៃទស្សនៈទាំងពីររបស់សាសនវិទូឥស្លាម។

**30-តើពេលណាទើបគេចាប់ផ្តើមអៀកតីកាហ្វ?**

ច-គេចាប់ផ្តើមអៀកតីកាហ្វនៅយប់ទី២១ នៃខែរ៉ម៉ាឌន។ នេះជាទស្សនៈរបស់សាសនវិទូឥស្លាមភាគច្រើន ហើយលោកម្ហាំម៉ាត់ កួន អ៊ូស្នៃមីនបានជ្រើសរើសវា។

31-តើពេលណាទើបអ្នកអៀកតីកាហ្វចេញអំពីការអៀកតីកាហ្វរបស់គាត់វិញ?

ច-គាត់ត្រូវចេញអំពីការអៀកតីកាហ្វរបស់គាត់វិញនៅពេលចប់ខែរ៉ម៉ាឌន ហើយខែរ៉ម៉ាឌនបញ្ចប់ដោយថ្ងៃលិចនៃយប់រ៉យ៉ា (ឃើញខ្នើតខែស្សាវ៉ាល)។

**32-តើអ្វីខ្លះជាធម្មទ្រើរបស់អ្នកអៀកតីកាហ្វ?**

ច-គឺការគោរពសក្ការៈដែលមានលក្ខណៈពិសេសរវាងគាត់នឹងអល់ឡោះដូចជាការសូត្រគម្ពីរគួរអាន ការប្រតិបត្តិសឡាតស៊ុណ្ណិត(សឡាតដោយស្ម័គ្រចិត្តមិនមែនកាតព្វកិច្ច) ការបួងសួងសុំទូអា។ល។

**33-តើច្បាប់ចែងយ៉ាងដូចម្ដេចចំពោះការចេញរបស់អ្នកអៀកតីកាហ្វអំពីកន្លែងអៀកតីកាហ្វរបស់គាត់?**

ច-ការចេញរបស់អ្នកអៀកតីកាហ្វអំពីកន្លែងអៀកតីកាហ្វរបស់គាត់គឺធ្វើឲ្យខូចអៀកតីកាហ្វនោះលើកលែងតែមានការ

ចាំបាច់ដូចជាការយកទឹកវុហ្ម(ទឹកសាំប៉ះយ៉ាំង) ការបន្ទោរបង់ ការងូតទឹក។ល។

អាល់ពូខរីនិងមូស្លីមបានរាយការណ៍នៅក្នុងគម្ពីរសហេះរបស់ពួកគាត់ទាំងពីរអំពីហាទីស្អអាអ៊ីស្សះ(រឌអ)ថាៈ

« كَانَ رَسُول اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ لَا يَدْخُلُ الْبَيْتَ إِلَّا لِحَاجَةِ». رواه البخاري ومسلم.

មានន័យថាៈ «រ៉សូលុលឡោះ(សអវ)ពេលអៀកតីកាហ្វមិនចូលផ្ទះទេលើកលែងតែក្នុងករណីចាំបាច់»។ (រាយការណ៍ដោយអាល់ពូខរីនិងមូស្លីម)

ហើយអាពូដាវូទបានរាយការណ៍នៅក្នុងគម្ពីរស៊ូណាន់របស់គាត់អំពីអាអ៊ីស្ស៊ះ (រឧអ)ថា:

« السُّنَّةُ عَلَى الْمُعْتَكِفِ أَنْ لَا يَعُودَ مَرِيضًا وَلَا يَشْهَدَ جَنَازَةً وَلَا يَمَسَّ امْرَأَةً وَلَا يُبَاشِرَهَا وَلَا يَخْرُجَ لِحَاجَةٍ إِلَّا لِمَا لَا بُدَّ مِنْهُ». رواه أبو داود.

មានន័យថា: « តាមស៊ុណ្ណះសំរាប់អ្នកអៀកតីកាហ្វគឺមិនត្រូវចេញទៅសួរសុខទុក្ខអ្នកជម្ងឺមិនត្រូវទៅចូលរួមកម្មវិធីសព (សួរសុខទុក្ខឬហែសព)មិនត្រូវរួមដំណេកឬប៉ះពាល់ភរិយា ហើយមិនត្រូវចេញអំពីម៉ាស្ជិតនោះទេលើកលែងលើកិច្ចការចាំបាច់ខានមិនបាន»។ អាពូដាវូទបានបញ្ជាក់បន្ទាប់ពីសេចក្ដីរាយការណ៍នេះថា

ក្រៅអំពីអាប់ទុលរ៉ោះម៉ានកូនអ៊ុស្លាកគេ មិននិយាយថាអាអ៊ុស្ស៊ុះបានមានសាសន៍ នូវពាក្យថាៈ «តាមស៊ុណ្ណះ»នោះទេ។

**34-តើច្បាប់ឥស្លាមចែងយ៉ាងណាចំពោះការសន្លាតតារ៉ែវ៉ែស?**

ច-វាជាប្រការស៊ុណ្ណះ(គប្បីធ្វើ)ហើយ រ៉ស៊ូលុលឡោះ(សអវ)បានសន្លាតវាចំនួន បីយប់(នៅម៉ាស្ជិត)ជាមួយនឹងសហាហ្គាត់ របស់លោក។លោកមិនបានបោះបង់វា ចោលទេលើកលែងតែដោយសារខ្លាចគេ ដាក់វាជាកាតព្វកិច្ច។

## 35-តើសំរាប់ការសឡាតស៊ូណិតនៅពេលយប់ មានកំណត់ចំនួនរ៉កាត់ឬទេ?

ច-មិនមានកំណត់ចំនួនរ៉កាត់នោះទេ ប៉ុន្តែតាមស៊ុណ្ណះដែលរ៉ស៊ូលុលឡោះ(សអវ)អនុវត្តនោះគឺ១១រ៉កាត់។
អាល់ពូខរី និងមូស្លីមបានរាយការណ៍អំពីហាទីស្ហអាអ៊ីស្ស៉ះ(រឌអ)ថា:

« مَا كَانَ رَسُولُ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ يَزِيدُ فِي رَمَضَانَ وَلا فِي غَيْرِهِ عَلَى إِحْدَى عَشْرَةَ رَكْعَةً ». رواه البخاري ومسلم.

មានន័យថា: «រ៉ស៊ូលុលឡោះ(សអវ)មិនធ្លាប់បន្ថែមសឡាតស៊ូណិតនៅពេលយប់លើសពី១១រ៉កាត់នោះទេ ទោះជានៅក្នុង

ខែរ៉ម៉ាឌនឬនៅក្នុងខែផ្សេង»។
(រាយការណ៍ដោយ អាល់ពូខរីនិងមូស្លីម)
ប៉ុន្តែប្រសិនបើបុគ្គលម្នាក់ប្រតិបត្តិសឡាត
១៣រ៉ក្អាត់ក៏គ្មានបញ្ហាដែរព្រោះមានសេច
ក្តីរាយការណ៍ផ្សេងបានបញ្ជាក់ថាវាគឺជា
ស៊ុណ្ណះដែរ ហេតុនេះអាចសឡាតលើស
ចំនួននេះឬតិចជាងនេះក៏គ្មានបញ្ហាដែរ។

**36-តើអ្វីទៅជាលក្ខណៈសំគាល់យប់ឡៃឡាតុលកទើរ?**

ច-មានសេចក្តីរាយការណ៍ខ្លះអំពីណាពី
(សអវ)បានបញ្ជាក់អំពីលក្ខណៈរបស់វា។
នៅក្នុងនោះមានសេចក្តីរបស់អ៊ីម៉ាំមូស្លីម

នៅក្នុងគម្ពីរសហេះរបស់គាត់អំពីហាទីស្ហ
អ៊ូពៃកូនកាក់ព៍(រឌអ)ថា:

« بِالْعَلَامَةِ أو بِالآيَةِ الَّتِي أَخْبَرَنَا رَسُوْلُ اللهِ صلى الله عليه وسلم أَنَّهَا تَطْلُعُ يَوْمَئِذٍ لَا شُعَاعَ لَهَا ».

មានន័យថា:«ដោយផ្អែកលើលក្ខណៈ
សំគាល់ឬភស្តុតាងដែលរ៉សូលុលឡោះ
(សអរ) បានប្រាប់ពួកយើងនោះគឺវា (ព្រះ
អាទិត្យ)រះនៅថ្ងៃនោះគ្មានកាំរស្មី»។
ហើយវាស្ថិតនៅក្នុង១០យប់ចុងក្រោយ
នៃខែរ៉ម៉ាឌនហើយគេត្រូវស្វែងរកនៅយប់
សេសនៃ១០យប់នេះ។

نسأل الله تعالى أن يبلغنا رمضان، وأن يعيننا على الصيام والقيام والإحسان إلى الخلق، والله تعالى أعلم

وصلى الله على نبينا محمد وعلى آله وصحبه أجمعين.

យើងខ្ញុំសុំអំពីអល់ឡោះមេត្តាឲ្យពួកយើងខ្ញុំបានជួបនឹងខែរ៉ម៉ាឌន ហើយសូមទ្រង់មេត្តាជួយពួកយើងក្នុងការបួស ក្នុងការប្រតិបត្តិសឡាត និងក្នុងការធ្វើល្អចំពោះសត្វលោកទាំងឡាយដែលទ្រង់បានបង្កើត ហើយអល់ឡោះគឺជាអ្នកដឹងបំផុត។ សូមអល់ឡោះប្រទានពរជ័យដល់ណាពីរបស់យើងមូហាំម៉ាត់ និងគ្រួសាររបស់លោកព្រមទាំងសហាហ្បាត់របស់លោកទាំងអស់។



المراجع:

1-مفطرات الصيام المعاصر للدكتور أحمد الخليل

2-فتاوى الشيخ محمد بن عثيمين رحمه الله

3-فتاوى الشيخ عبد العزيز بن باز رحمه الله

4-شرح عمدة الفقه للشيخ د.عبد الله بن عبد العزيز بن جبرين رحمه الله.

5-وغيرها من كتب السنة

جمع وترتيب/

مضحي بن عبيد الشمري

عضو الدعوة والإرشاد بوزارة الشؤون الإسلامية والدعوة والإرشاد

# ឌូអាសំខាន់ៗមួយចំនួន

## ឌូអាពេលស្រាយបួស

- «ذَهَبَ الظَّمَأُ ، وَابْتَلَّتِ الْعُرُوقُ ، وثَبتَ الأَجْرُ إِنْ شَاءَ اللَّهُ». رواه أبو داود. (حسن الألباني رحمه الله).

## ឬសូត្រថា

- «اللَّهُمَّ لَكَ صُمْتُ وَعَلَى رِزْقِكَ أَفْطَرْتُ».

رواه أبو داود مرسلا. (ضعيف).

## ត្បីកៀរក្រោយពេលសឡាតវីតៀរ

- « سُبْحَانَ الْمَلِكِ الْقُدُّوسِ».

ចំនួនបីដង

# ទូអាមួយចំនួននៅក្នុងគួរអាន

- ((رَبَّنَا آتِنَا فِي الدُّنيَا حَسَنَةً وَفِي الآخِرَةِ حَسَنَةً وَقِنَا عَذَابَ النَّارِ)) [البقرة: 201].

- ((رَبَّنَا لا تُؤَاخِذنَا إِن نَسِينَا أَو أَخطَأنَا رَبَّنَا وَلا تَحمِل عَلَينَا إِصرًا كَمَا حَمَلتَهُ عَلَى الَّذِينَ مِن قَبلِنَا رَبَّنَا وَلا تُحَمِّلنَا مَا لا طَاقَةَ لَنَا بِهِ وَاعفُ عَنَّا وَاغفِر لَنَا وَارحَمنَا أَنتَ مَولانَا فَانصُرنَا عَلَى القَومِ الكَافِرِينَ)) [البقرة: 286].

- ((رَبَّنَا لا تُزِغ قُلُوبَنَا بَعدَ إِذ هَدَيتَنَا وَهَب لَنَا مِن لَدُنكَ رَحمَةً إِنَّكَ أَنتَ الوَهَّابُ)) [آل عمران: 8].

- ((رَبَّنَا إِنَّنَا آمَنَّا فَاغفِر لَنَا ذُنُوبَنَا وَقِنَا عَذَابَ النَّارِ)) [آل عمران: 16].

- ((رَبَّنَا اغفِر لَنَا ذُنُوبَنَا وَإِسرَافَنَا فِي أَمرِنَا وَثَبِّت أَقدَامَنَا وَانصُرنَا عَلَى القَومِ الكَافِرِينَ)). [آل عمران: 147].

- ((رَبَّنَا آتِنَا مِن لَدُنكَ رَحمَةً وَهَيِّئ لَنَا مِن أَمرِنَا رَشَدًا)) [الكهف: 10].

- ((رَبَّنَا اغفِر لَنَا وَلِإِخوَانِنَا الَّذِينَ سَبَقُونَا بِالإِيمَانِ وَلا تَجعَل فِي قُلُوبِنَا غِلًّا لِلَّذِينَ آمَنُوا رَبَّنَا إِنَّكَ رَءُوفٌ رَحِيمٌ)) [الحشر: 10].

## ទូអាមួយចំនួនដែលមាននៅក្នុងស៊ុណ្ណះ

- {اللهمّ اغْفِرْ لِي خَطِيئَتِي وَجَهْلِي وَإِسْرَافِي فِي أَمْرِي كُلِّهِ وَمَا أَنْتَ أَعْلَمُ بِهِ مِنِّي اللَّهُمَّ اغْفِرْ لِي خَطَايَايَ وَعَمْدِي وَجَهْلِي وَهَزْلِي وَكُلُّ ذَلِكَ عِنْدِي

اللَّهُمَّ اغْفِرْ لِي مَا قَدَّمْتُ وَمَا أَخَّرْتُ وَمَا أَسْرَرْتُ وَمَا أَعْلَنْتُ أَنْتَ الْمُقَدِّمُ وَأَنْتَ الْمُؤَخِّرُ وَأَنْتَ عَلَى كُلِّ شَيْءٍ قَدِيرٌ } [البخاري ح رقم: (**6398**)، ومسلم رقم: (**2719**)].

- { اَللَّهُمَّ إِنِّي ظَلَمْتُ نَفْسِي ظُلْمًا كَثِيرًا وَلَا يَغْفِرُ الذَّنْبَ إِلَّا أَنْتَ، فَاغْفِرْ لِي مَغْفِرَةً مِنْ عِنْدِكَ، وَارْحَمْنِي إِنَّكَ أَنْتَ الْغَفُورُ الرَّحِيمُ } البخاري (**834**) و (**6326**) ، ومسلم (**2705**

- { اَللَّهُمَّ إِنِّي عَبْدُكَ ابْنُ عَبْدِكَ ابْنُ أَمَتِكَ، نَاصِيَتِي بِيَدِكَ، مَاضٍ فِيَّ حُكْمُكَ، عَدْلٌ فِيَّ قَضَاؤُكَ، أَسْأَلُكَ بِكُلِّ اسْمٍ هُوَ لَكَ، سَمَّيْتَ بِهِ نَفْسَكَ، أَوْ أَنْزَلْتَهُ فِي كِتَابِكَ، أَوْ عَلَّمْتَهُ أَحَدًا مِنْ خَلْقِكَ، أَوِ اسْتَأْثَرْتَ بِهِ فِي عِلْمِ الْغَيْبِ عِنْدَكَ، أَنْ تَجْعَلَ الْقُرْآنَ رَبِيعَ قَلْبِي،

وَنُورَ صَدْرِي، وَجَلَاءَ حُزْنِي، وَذَهَابَ هَمِّي } [انظر: السلسلة الصحيحة رقم (198)].

- { اَللَّهُمَّ إِنِّي أَعُوذُ بِرِضَاكَ مِنْ سَخَطِكَ وَبِمُعَافَاتِكَ مِنْ عُقُوبَتِكَ وَأَعُوذُ بِكَ مِنْكَ لَا أُحْصِي نِعَمَكَ وَلَا ثَنَاءً عَلَيْكَ أَنْتَ كَمَا أَثْنَيْتَ عَلَى نَفْسِكِ } [مسلم رقم (486)].

- { اللَّهُمَّ آتِ نَفْسِي تَقْوَاهَا وَزَكِّهَا أَنْتَ خَيْرُ مَنْ زَكَّاهَا أَنْتَ وَلِيُّهَا وَمَوْلَاهَا اللَّهُمَّ إِنِّي أَعُوذُ بِكَ مِنْ قَلْبٍ لَا يَخْشَعُ وَنَفسٍ لَا تَشْبَعُ وَعِلْمٍ لَا يَنْفَعُ وَدَعْوَةٍ لَا يُسْتَجَابُ لَهَا } [مسلم رقم (2722)].

- { اللَّهُمَّ إِنِّي أَسْأَلُكَ الْهُدَى وَالتُّقَى وَالْعَفَافَ وَالْغِنَى } [مسلم رقم (2721)].

- { اللَّهُمَّ إِنَّكَ عُفُوٌّ كَرِيمٌ تُحِبُّ الْعَفْوَ فَاعْفُ عَنِّي}

## مختارات من دعاء القنوت

## ទូអាខ្លះៗសំរាប់គូណុតទីតៀះ

اللَّهُمَّ اهْدِنَا فِيمَنْ هَدَيْتَ، وَعَافِنَا فِيمَنْ عَافَيْتَ، وَتَوَلَّنَا فِيمَنْ تَوَلَّيْتَ، وَبَارِكْ لَنَا فِيمَا أَعْطَيْتَ، وَقِنَا شَرَّ مَا قَضَيْتَ، إِنَّكَ تَقْضِي وَلَا يُقْضَى عَلَيْكَ، وَإِنَّهُ لَا يَذِلُّ مَنْ وَالَيْتَ، تَبَارَكْتَ وَتَعَالَيْتَ. لَكَ الْحَمْدُ عَلَى مَا قَضَيْتَ .. وَلَكَ الشُّكْرُ عَلَى مَا أَعْطَيْتَ .. نَسْتَغْفِرُكَ اللَّهُمَّ مِنْ جَمِيْعِ الذُّنُوْبِ وَالْخَطَايَا وَنَتُوْب إِلَيْك.

اَللَّهُمَّ اقْسِمْ لَنَا مِنْ خَشْيَتِكَ مَا يَحُولُ بَيْنَنَا وَبَيْنَ مَعَاصِيكَ، وَمِنْ طَاعَتِكَ مَا تُبَلِّغُنَا بِهِ رَحْمَتَكَ، وَمِنَ الْيَقِينِ مَا تُهَوِّنُ بِهِ عَلَيْنَا مُصِيبَاتِ الدُّنْيَا، وَمَتِّعْنَا بِأَسْمَاعِنَا وَأَبْصَارِنَا وَقُوَّتِنَا مَا أَحْيَيْتَنَا، وَاجْعَلْهُ الْوَارِثَ مِنَّا، وَاجْعَلْ ثَأْرَنَا عَلَى مَنْ ظَلَمَنَا، وَانْصُرْنَا عَلَى مَنْ

عَادَانَا، وَلَا تَجْعَلْ مُصِيبَتَنَا فِي دِينِنَا، وَلَا تَجْعَلِ الدُّنْيَا أَكْبَرَ هَمِّنَا وَلَا مَبْلَغَ عِلْمِنَا، وَلَا تُسَلِّطْ عَلَيْنَا مَنْ لَا يَرْحَمُنَا .اللَّهُمَّ أَصْلِحْ لَنَا دِينَنَا الَّذِي هُوَ عِصْمَةُ أَمْرِنَا ، وَأَصْلِحْ لَنَا دُنْيَانَا الَّتِي فِيهَا مَعَاشُنَا ، وَأَصْلِحْ لَنَا آخِرَتَنَا الَّتِي فِيهَا مَعَادُنَا ، وَاجْعَلِ الْحَيَاةَ زِيَادَةً لَنَا فِي كُلِّ خَيْرٍ ، وَاجْعَلِ الْمَوْتَ رَاحَةً لَنَا مِنْ كُلِّ شَرٍّ.

اللَّهُمَّ إِنَّا نَسْأَلُكَ فِعْلَ الْخَيْرَاتِ، وَتَرْكَ الْمُنْكَرَاتِ، وَحُبَّ الْمَسَاكِينِ.. وَأَنْ تَغْفِرَ لَنَا وَتَرْحَمَنَا وَتَتُوبَ عَلَيْنَا .. وَإِذَا أَرَدْتَ فِتْنَةً فِي قَوْمٍ فَتَوَفَّنَا غَيْرَ مَفْتُونِيْنَ.. اَللَّهُمَّ إِنَّا نَسْأَلُكَ حُبَّكَ وَحُبَّ مَنْ يُحِبُّكَ وَحُبَّ عَمَلٍ يُقَرِّبُنَا إِلَى حُبِّكَ.. يَا رَبَّ الْعَالَمِيْنَ .

اللَّهُمَّ اغْفِرْ لِلْمُسْلِمِينَ وَالْمُسْلِمَاتِ، وَالْمُؤْمِنِينَ وَالْمُؤْمِنَاتِ، وَأَصْلِحْ ذَاتَ بَيْنِهِمْ، وَأَلِّفْ بَيْنَ قُلُوبِهِمْ،

وَاجْعَلْ قُلُوبَهُمْ عَلَى قُلُوبِ خِيَارِهِمْ.
اَللَّهُمَّ اغْفِرْ لَنَا .. وَارْحَمْنَا .. وَأَعْتِقْ رِقَابَنَا مِنَ النَّارِ
رَبَّنَا تَقَبَّلْ مِنَّا إِنَّكَ أَنْتَ السَّمِيعُ الْعَلِيمُ.. وَتُبْ عَلَيْنَا
إِنَّكَ أَنْتَ التَّوَّابُ الرَّحِيْمِ .. وَصَلى اللهم على نبينا
محمد وعلى آله وصحبه وسلم.

هذا... وصلى الله على نبينا محمد وعلى آله وصحبه وسلم تسليما كثيرا، والحمد لله رب العالمين.



